# វិទ្យាស្ថានជាតិពហុបច្ចេកទេសកម្ពុជា
# មហាវិទ្យាល័យអគ្គិសនី

# វេយ្យាករណ៍អង់គ្លេស




រៀបរៀងដោយ និស្សិត ស៊ុម សឿង

## សម្រាប់ប្រើប្រាស់របស់
## និស្សិតជំនាន់ទី៧នៃមហាវិទ្យាល័យអគ្គិសនី
## ក្នុងឆ្នាំសិក្សា ២០១២ » ២០១៣

គប់ពាលផងពាលទៅរកខុស គប់ប្រាជ្ញស្រីប្រុសផងបានត្រូវ គប់មិត្តអបលក្ខណ៍ផងអាស្រូវ ខុសត្រូវមកពីការសេពគប់!

មើលបានច្រើនប្រសើរជាងមើលបានតិច មើលទៅភ្លេចប្រសើរជាងមិនដែលមើលសោះ!

## អារម្ភកថា

សៀវភៅវេយ្យាករណ៍អង់គ្លេសនេះដែលបានរៀបរៀងឡើងនេះគឺជាការស្រាវជ្រាវមួយដែលបានស្រាវជ្រាវចេញពីសៀវភៅវេយ្យាករណ៍ល្អៗដែលយើងធ្វើវាឡើងយ៉ាងលំបាកទម្រាំនឹងកើតវាឡើងសម្រាប់ទុកជាស្នាដៃមួយនៅក្នុងឆ្នាំសិក្សានៅមហាវិទ្យាល័យនេះ។

ខ្លឹមសារនៅក្នុងសៀវភៅនេះគឺបានដកស្រង់នូវចំនុចមួយចំនួយធំដែលទាក់ទងទៅនឹងការប្រើប្រាស់កាលនៅក្នុងភាសាអង់គ្លេស ។អាស្រ័យហេតុនេះយើងខ្ញុំជឿជាក់ថាសៀវភៅនេះពិតជាមានការខ្វះខាតជាច្រើនជាក់ជាពុំខានព្រោះវាជាការសរសេរលើកទីមួយរបស់ខ្ញុំបាទ។

ជាទីបញ្ចប់យើងខ្ញុំនឹងរង់ចាំការណែនាំ អំពីសាស្ត្រាចារ្យនឹងមិត្តអ្នកសិក្សាទាំងអស់ដោយក្តីពេញចិត្តដើម្បីយកទុកធ្វើជាបទពិសោធន៍សម្រាប់ការស្រាវជ្រាវរបស់ខ្ញុំបាទនៅថ្ងៃខាងមុខ។

ភ្នំពេញថ្ងៃទី០៧ខែកក្កដាឆ្នាំ២០១៣
រៀបរៀងដោយនិស្សិត អគ្គសនីក្រុមCឆ្នាំទី១ជំនាន់ទី៧
នៃវិទ្យាស្ថានជាតិពហុបច្ចេកទេសកម្ពុជា

# សេចក្តីថ្លែងអំណរគុណ

ខ្ញុំបាទឈ្មោះ ស៊ុម សឿង ជានិស្សិត ផ្នែកអគ្គិសនីក្រុមC ថ្នាក់ឧត្តម ឆ្នាំទី១ ជំនាន់ទី៧ នៃវិទ្យាស្ថានជាតិពហុបច្ចេកទេសកម្ពុជា។

សូមធ្វើការគោរពនឹងថ្លៃងនូវសេចក្តីអំណរគុណនិងកត្តញ្ញូតាធម៌យ៉ាងជ្រាលជ្រៅបំផុតជូនចំពោះ៖

- មាតាបិតា ដែលលោកបានជួយទំនុកបំរុង ថវិកា និងស្មារតីជំរុញអោយខ្ញុំបាទមានទឹកចិត្តកាន់តែខ្លាំងឡើងតាំងពីបឋមរហូតដល់មហាវិទ្យាល័យដែលមានលក្ខណៈប្រកបដោយជោគជ័យ នឹងភាពមានសីលធម៌ សុជីវធម៌ទោះបីជាមានឧបសគ្គយ៉ាងណាក៏ដោយ។
- ឯកឧត្តម ប៊ុន ភារិន នាយកវិទ្យាស្ថានជាតិពហុបច្ចេកទេសកម្ពុជាដែលបានផ្តល់ឱកាសដល់ខ្ញុំបាទអោយបានចូលសិក្សា នឹងផ្តលដំបូលន្មានល្អៗដល់រូបខ្ញុំបាទក៏ដូចជានិស្សិតទាំងអស់។
- លោក មួង ផាស៊ី ប្រធានការិយាល័យសិក្សាដែលបានផ្តល់ដំបូន្មានល្អៗដល់រូបខ្ញុំបាទក៏ដូចជាមិត្តនិស្សិតទាំងអស់នៃវិទ្យាស្ថានជាតិពហុបច្ចេកទេសកម្ពុជា។
- លោកសាស្ត្រាចារ្យ ញឹក ផល្លី ដែលបានបង្ហាត់បង្រៀនដល់ខ្ញុំបាទនិងមិត្តនិស្សិតទាំងអស់ដោយមិនខ្លាចមានការនឿយហត់។
- លោក សាស្ត្រចារ្យ ទាំងអស់នៃ វិទ្យាស្ថានជាតិពហុបច្ចេកទេសកម្ពុជា គាត់បានបង្ហាត់បង្រៀន អប់រំផ្លូវចិត្ត សីលធម៌ វិជ្ជាជីវៈ ដោយមិនគិតពីការនឿយហត់។

# Unit1 Present simple បច្ចុប្បន្នកាលធម្មតា

## ✪ Definition (និយមន័យ)

The simple present Tense is used for an action that happens again and again, that is a habit or true about the world.គេប្រើបច្ចុប្បន្នកាលធម្មតាសម្រាប់សកម្មភាពដែលកើតឡើងដដែលៗឬជាទម្លាប់ឬការពិតនៅលើលោក។

Formula: (រូបមន្ត)

Subject + Verb (int)………

(ប្រធានបទ)(កិរិយាសព្ទ)

In the Present Tense all verbs are not changed when they are used with the first person (I, We) the second person (you )and the third person plural (They).

ក្នុងបច្ចុប្បន្នកាលធម្មតាគ្រប់កិរិយាសព្ទទាំងអស់មិនប្តូរទម្រង់របស់វាទេ កាលណាប្រើជាមួយបុរសទី១(I , We ),បុរសទី២(you)និងបុរសទី៣ពហុវចនៈ(They).។

Examples

I/ You/ We/ They => Go to school.

I/ You/ We/ They=> Speak English.

I/ You/ We/ They=> Eat apples

But there are some change of verbs when they are used with the third person singular (He, She, It).

ប៉ុន្តែវាមានការប្រែប្រួលមួយចំនួនរបស់កិរិយាសព្ទទី៣ឯកវចនៈ**(He, She , It).**។

១. First case (ករណីទី១)

In the Present Tense some verbs are changes by adding **s** when used with the Third Person singular (**(He, She, It).**

ក្នុងបច្ចុប្បន្នកាលធម្មតា កិរិយាស័ព្ទមួយចំនួនត្រូវប្តូរទម្រង់ដោយបន្ថែមអក្សរ**s** ទៅកាលណាគេយកវាទៅប្រើជាមួយបុរសទី៣ឯកវចនៈ**((He, She, It ).**។

Example

Work (ធ្វើការ)

He/ She/ It => Works

Sleep (ដេក)

He/ She/ It => Sleeps

Sing (ច្រៀង)

He/ She/ It => sings.

Eat (ស៊ី ហូប)

He/ She/ It => eats.

Come (មក ទៅ)

He/ She/ It => Comes.

Example1 My mother visits me every moth.
ម្តាយខ្ញុំមកលេងខ្ញុំជារៀងរាល់ខែ

Example2 He comes here every day.
គាត់មកទីនេះរាល់ថ្ងៃ

Example3 She plays piano every morning.
នាងលេងព្យាន្ធជារៀងរាល់ព្រឹក

Example4 It sleeps here every night.
វាដេកនៅទីនេះជារៀងរាល់យប់

Example5 My sister walks to school every day.
ប្អូនស្រីរបស់ខ្ញុំដើរទៅសាលារៀនរាល់ថ្ងៃ

Example6 My friend calls to me every night.
មិត្តភក្តិរបស់ខ្ញុំទូរស័ព្ទមកខ្ញុំជារៀងរាល់យប់

Example7 My girlfriend sends me a letter every moon
មិត្តស្រីរបស់ខ្ញុំផ្ញើសំបុត្រអោយខ្ញុំជារៀងរាល់យប់

Example8 My mother always cooks meal for me.
ម្តាយរបស់ខ្ញុំតែងតែចំអិនអាហារអោយខ្ញុំជារៀងរាល់យប់

## ២ Second Case (ករណីទី២)

Verb end in ss sh ch x or o are changed by adding es when used with the third person singular (He, She ,It).

កិរិយាស័ព្ទទាំងឡាយណាដែលបញ្ចប់ដោយអក្សរ ss sh ch x or o វាត្រូវប្តូរទម្រង់ដោយបន្ថែម es កាលណាគេយកវាទៅប្រើជាមួយបុរសទីពាឯកវចនៈ(He , She , It)។

Example

Kiss (ថើប)

He/ She/ It => Kisses.

Wash (លាងសម្អាត)

He/ She/ It => Washes.

Watch (មើល)

He/ She/ It => Watches.

Box (ប្រដាល់ ដាក់ក្នុងប្រអប់)

He/ She/ It => Boxes

Go (ទៅ

He/ She/ It => goes.

Example1 He usually kisses his granddaughter every night.
ជាធម្មតាគាត់ថើបចៅស្រីរបស់គាត់ជារៀងរាល់យប់

Example2 My father washes his car every Sunday.
ឪពុករបស់ខ្ញុំលាងរថយន្តរបស់គាត់រៀងរាល់ថ្ងៃអាទិត្យ

Example3 My mother watches T.V every day.
ម្តាយរបស់ខ្ញុំមើលទូរទស្សន៍រៀងរាល់យប់

Example4 She goes to school with me every day.
នាងទៅសាលាជាមួយខ្ញុំជារៀងរាល់ថ្ងៃ

៣.Third Case (ករណីទី៣)

Verbs ending with y following a vowel are changed by adding s when used with the third person singular (He, She, It).

កិរិយាស័ព្ទទាំងឡាយណាដែលបញ្ចប់ដោយy នៅខាងចុង ហើយនាំមុខដោយស្រៈវាត្រូវប្តូរទម្រង់ដោយបន្ថែមអក្សរ s កាលណាគេយកវាទៅប្រើជាមួយបុរសទី៣(He, She, It).។

Example

Play (លេង សម្តែង)

He/ She/ It => plays

Stay (ស្នាក់នៅ)

He/ She/ It => stays

Buy (ទិញ)

He/ She/ It => buys

Say (និយាយ)

He/ She/ It => says

Obey(ស្តាប់បង្គាប់)

He/ She/ It => obeys

Pray (បួងសួង)

He/ She/ It => prays

Pay (បង់លុយ ចំនាយ)

He/ She/ It => pays.

Example1 He plays football every evening.
គាត់លេងបាល់ទាត់ជារៀងរាល់ល្ងាច

Example2 Dara always obeys his parents.
ដារ៉ាតែងតែស្តាប់បង្គាប់ម្តាយឪពុករបស់គាត់

Example3 My mother buys me an orange every day.
ម្តាយខ្ញុំទិញក្រូចពោធិសាត់អោយខ្ញុំមួយផ្លែរាល់ថ្ងៃ

Example4 She always prays for happiness.
នាងតែងតែបួងសួងសុំសេចក្តីសុខ

Example5 He pays me every day.
គាត់ចេញលុយអោយខ្ញុំរាល់ថ្ងៃ
គាត់ប៉ាវខ្ញុំរាល់ថ្ងៃ

Example6 He stays with me every day.
គាត់ស្នាក់នៅជាមួយខ្ញុំរាល់ថ្ងៃ

## 4. Fourth Case (ករណីទី៤)

Verb ending with Y following a consonant are changed by dropping y and add ies when used with the third person singular.កិរិយាសព្ទទាំងឡាយដែលបញ្ចប់ដោយអក្សរ Yនៅខាងចុងហើយនាំមុខដោយព្យញ្ជនៈវាត្រូវប្តូរទម្រង់ដោយលុបអក្សរ Y ចោលរួចហើយបន្ថែម ies កាលណាគេយកវាទៅប្រើជាមួយបុរសទីពឯកវចនៈ។

- Fly (ហោះហើរ ធ្វើដំណើរតាមយន្តហោះ)
  He/ She/ It => fl<u>ies</u>.
- Copy (ថតចម្លង)
  He/ She/ It => cop<u>ies</u>.
- Try (ព្យាយាម សាកល្បង.ល.)
  He/ She/ It => tr<u>ies</u>.
- Satisfy (បំពេញបំណង ផ្គាប់ចិត្ត)
  He/ She/ It => Satisf<u>ies</u>.

<u>Example</u> She always cries when she meets the difficulties.
នាងតែងតែយំនៅពេលដែលនាងជួបការលំបាក។

<u>Example</u> My boss flies to Hong Kong every year.
ចៅហ្វាយខ្ញុំធ្វើដំណើរតាមយន្តហោះទៅទីក្រុងហុងកុងជារៀងរាល់ឆ្នាំ។

<u>Example</u> She tries to cheat me, but it is impossible.
នាងព្យាយាមបោកប្រាស់ខ្ញុំប៉ុន្តែមិនអាចទៅរួច។

<u>Example</u> She copies all documents for her boss every day.
នាងថតចម្លងឯកសារទាំងអស់អោយចៅហ្វាយរបស់នាងជារៀងរាល់ថ្ងៃ។

<u>Example</u> The van carries milk here every morning.
រថយន្តដឹកទឹកដោះគោមកទីនេះរៀងរាល់ព្រឹក។

<u>Example</u> She satisfies her husband so much.
នាងផ្គាប់ចិត្តប្តីរបស់នាងណាស់។

Example The peacock flies here every night.
សត្វក្ងោកហើរមកទីនេះរាល់យប់។

✪ Question (ប្រយោគសំណួរ)

Formula (រូបមន្ត)

(១) Do+ Subject +Verb (infinitive)

រូបមន្តនេះប្រើសម្រាប់បុរសទី១(I ,We)បុរសទី២(You)និងបុរសទី៣ពហុវចនៈ(They)។

Example១: Do you love her?
តើអ្នកឯងស្រលាញ់នាងទេ?

Example២: Do they come here every day?
តើពួកគេមកទីនេះរាល់ថ្ងៃមែនទេ?

Example៣: Do we agree with him?
តើយើងយល់ព្រម និងគាត់ទេ?

Example៤: Do I need a lot of money?
តើខ្ញុំត្រូវការលុយច្រើនមែនទេ?

(២) Does +Subject+ Verb(infinitive)

រូបមន្តនេះប្រើសម្រាប់បុរសទី៣ឯកវចនៈ(He, She, It)

Example១ Does she buy a lot of book?
តើនាងទិញសៀវភៅច្រើនមែនទេ?

Example២ Does your mother come here every month?
តើម្តាយអ្នកមកទីនេះរាល់ខែមែនទេ?

Example៣ Does Mr Sok love you?
តើលោកសុខស្រលាញ់នាងមែនទេ?

Example៤ Does he stay with you now?
តើគាត់សព្វថ្ងៃនេះនៅជាមួយអ្នកមែនទេ?

Example៥ Does she try to learn English?
តើនាងព្យាយាមរៀនភាសាអង់គ្លេស?

❋ Negative(ប្រយោគបដិសេធ)

Subject +do+ not +Verb (infinitive)
រូបមន្តប្រើសម្រាប់បុរសទី១បុរសទី២និងបុរសទី៣ពហុវចនៈ។

Do+ not =>don’t

Example1 I do not understand.
I don't understand.
ខ្ញុំមិនយល់ទេ

Example2 We do not need your money.
We don't need your money.
យើងមិនត្រូវការលុយរបស់អ្នកទេ

Example3 You do not understand.
You don't understand.
អ្នកឯងមិនយល់ទាល់តែសោះ

Example4 All my friends do not love you.
All my friends don't love you.
មិត្តភក្តិខ្ញុំទាំងអស់មិនស្រលាញ់អ្នកទេ

Example5 They do not want to see you anymore.
They don't want to see you anymore.ពួកគេមិនចង់ជួបអ្នកទៀតទេ

Example6 My brothers do not come here today.
My brother doesn't come here today.
បងៗប្រុសរបស់ខ្ញុំមិនមកទីនេះទេក្នុងថ្ងៃនេះ។

❖ **Subject +does +not +verb (infinitive)**

Does + not = doesn't
រូបមន្តនេះប្រើសម្រាប់តែបុរសទីពាងករវចនៈ

Example He does not love you.
He doesn't love you.
គាត់មិនស្រលាញ់អ្នកទេ។

Example My mother does not watch T.V today.
My mother doesn't watch T.V today.
ថ្ងៃនេះម្តាយខ្ញុំមិនមើលទូរទស្សន៍ទេ។

Example The bird does not fly here today.
The bird doesn'tfly here today.
សត្វបក្សីមិនហើរមកទីនេះទេថ្ងៃនេះ។

Present Simple Passive Voice

| |
|---|
| Subject+ am+ past participle+ (By)........<br>ប្រធានបទ+ am+ កិរិយាសព្ទជួរទី៣+ (By)........ |
| Subject+ is+ past participle+ (By)........<br>ប្រធានបទ+ is+ កិរិយាសព្ទជួរទី៣+ (By)........ |

Subject+ are+ past participle+ (By)........

ប្រធានបទ+ are+ កិរិយាសព្ទជួរទី៣+ (By)........

Note

ពាក្យ By អាចលុបចោលបានកាលណាយើងដឹងថានរណាជាអ្នកធ្វើសកម្មភាពវឺវាមិនសំខាន់។

Example Thousands of people are cured every day.
Thousands of cured by doctors every day.
មនុស្សរាប់ពាន់នាក់ត្រូវបានព្យាបាលរាល់ថ្ងៃ។

Example Hundred Kilograms of meat is eaten by crocodile.
សាច់រាប់រយគីឡូក្រាមត្រូវបានក្រពើស៊ីរាល់ថ្ងៃ។

Example Ten cows are killed every day.
គោញី១០ក្បាលត្រូវបានគេសម្លាប់រាល់ថ្ងៃ។

Example Million liters of gasoline is used every day.
ប្រេងសាំងរាប់លានលីត្រត្រូវបានគេប្រើជារៀងរាល់ឆ្នាំ។

Example This table is destroyed by Mr Sok.
តុនេះត្រូវបានបផ្លាញដោយលោកសុខ
លោកសុខជាអ្នកបផ្លាញតុនេះ។

ស្រលាញ់កុំទៅញ៉ាំកក្រលឹកចាំទៅម្តង!

# Unit2 Present continuous (បច្ចុប្បន្នកាលកំពុងបន្ត)

**Definition (និយមន័យ)**

The Present continuous Tense is used for an action happing now (at the moment of speaking) or around now.

គេប្រើបច្ចុប្បន្នកាលកំពុងបន្តសម្រាប់សកម្មភាពដែលកំពុងកើតឡើងនៅពេលដែលកំពុងនិយាយឬកំពុងតែកើតឡើងក្នុងពេលបច្ចុប្បន្នកាល។

**Formula**(រូបមន្ត)

A. Positive (ប្រយោគស្រប)

Subject +am/is /are +verb +ing

ប្រធាន+am/is /are +កិរិយាស័ព្ទ+ing

Example

1. I am cooking dinner.ខ្ញុំកំពុងចំអិនអាហារពេលល្ងាច
2. You are playing football.អ្នកឯងកំពុងលេងបាល់
3. He is speaking English.គាត់កំពុងតែនិយាយភាសាអង់គ្លេស
4. We are watching T.V.ពួកយើងកំពុងតែមើលទូរទស្សន៍
5. It is raining now.ឥលូវនេះមេឃកំពុងតែភ្លៀង

How to add ing

1. First case :

Verb ending with a sigle

Example

- Dance (រាំ) => Dancing
- Drive (បើកបររថយន្ត)=>Driving
- Ride (ជិះកង់ ម៉ូតូ សេះ)=>Riding
- Write (សរសេរ និពន្ធ)=>writing
- Refuse (បដិសេធ) =>refusing
- Accuse(ចោទប្រកាន់)=> accusing
- Release (ដោះលេង) =>releasing
- Come (មកដល់ ទោះ=> Coming
- Arrive (មកដល់ ទៅដល់)=> Arriving
- Take (យក នាំយក) => taking

- Phone (និយាយទូរស័ព្ទ) => phoning
- Describe (និយាយរៀបរាប់) => Describing
- Change (ផ្លាស់ប្តូរ) => Changing
- Move (រំកិល ផ្លាស់ទី) Moving
- Give (អោយ) Giving

Example:

- Botha is dancing in her room.
- បុប្ផាកំពុងតែរាំនៅក្នុងបន្ទប់របស់នាង។
- I'm driving to school.
- ខ្ញុំកំពុងបើកបររថយន្តទៅសាលារៀន។
- We are riding horses.
- ពួកយើងកំពុងជិះសេះ។
- They are coming now.
- ឥឡូវនេះកំពុងតែមកហើយ។
- My father is phoning his friend.
- ឪពុករបស់ខ្ញុំកំពុងតែនិយាយទូរស័ព្ទទៅកាន់មិត្តភក្តិរបស់គាត់។

2/ Second Cass: (ករណីទី២)

Verb ending with double e we add ing

កិរិយាស័ព្ទទាំងឡាយណាបញ្ចប់ដោយអក្សរ e ពីរគឺយើងបន្ថែម ing តែម្តង។

Example

Agree => agreeing (យល់ព្រម)

Flee => Fleeing (ភៀសខ្លួនរត់គេច)

See => seeing (រកមើល យល់)

៣/ Third Cass : (ករណីទី៣)

Verb end with ie, we change i.e. to y before adding ing

នៅពេលកិរិយាស័ព្ទទាំងឡាយណាបញ្ចប់ដោយអក្សរ ie នៅខាងចុងយើងត្រូវប្តូរ ie អោយទៅជាអក្សរ y ទើបយើងបន្ថែម ing ជាក្រោយ។

Example

Lie lying (កុហក ដេក សន្ធឹង)

Tie tying (ចង)

Die dying (ស្លាប់)

Ex1: My father is lying on the beach.

ឪពុករបស់ខ្ញុំកំពុងដេកសន្លឹងនៅលើឆ្នេរសមុទ្រ។

Ex2: You are lying to me.
អ្នកកំពុងនិយាយកុហកខ្ញុំ។

Ex3: You are lying to yourself.
អ្នកកំពុងតែកុហកខ្លួនឯងហើយ។

Ex4: Cambodia is tying relationship with Vietnam.
ប្រទេសកម្ពុជាកំពុងចងមិត្តភាពជាមួយប្រទេសវៀតណាម។

Ex5: My friend is tying his dog.
មិត្តរបស់ខ្ញុំកំពុងតែចងឆ្កែរបស់គាត់។

៤/ Fourth Cass : (ករណីទី៤)

Verb of one syllable have one vowed end in a single consonant, the consonant is doubled before adding ing.

កិរិយាទាំងឡាយណាមានមួយព្យាង្គមានស្រៈមួយហើយបញ្ចប់ដោយដោយអក្សរព្យញ្ជនៈតែមួយគត់នៅខាងចុងយើងត្រូវសរសេរព្យញ្ជនៈនេះ អោយបានពីរសិនទើបបន្ថែមing។

**Example**

| | | |
|---|---|---|
| Stop | Stopping | ឈប់ បញ្ឈប់ |
| Put | Putting | ដាក់ |
| Sit | Sitting | អង្គុយ |
| Drop | Dropping | ទំលាក់ |
| Cut | Cutting | កាត់ កាប់ |
| Get | Getting | ទទួលយក |
| Swim | Swimming | ហែលទឹក |
| Shop | Shopping | ទិញឥវ៉ាន់ |
| Slap | Slapping | ទះកំភ្លៀង |
| Chop | Chopping | កាប់ |
| Hit | Hitting | វាយ បុក |
| Clap | Clapping | ទះដៃ |
| Dig | Digging | ជីក |
| Run | Running | រត់ |
| Rob | Robbing | ប្លន់ |

| | | |
|---|---|---|
| Step | Stepping | ជ្បោះជំហ៊ាន |
| Beg | Begging | សុំ |
| Rub | Rubbing | ដុស |

Example1 My mother is swimming in the river.
ម្ដាយខ្ញុំកំពុងហែលទឹកក្នុងទន្លេ។

Example2 The dog is running in the garden.
ឆ្កែកំពុងតែរត់លេងនៅក្នុងសួនច្បារ។

Example3 The robbers are robbing the bank.
ពួកចោរប្លន់កំពុងតែប្លន់ធនាគារ។

Example4 we are digging the well.
ពួកយើងកំពុងតែជីកអណ្ដូង។

Example5 I am cutting banana tree.
ខ្ញុំកំពុងតែកាប់ដើមចេក។

Fifth Cass: ករណីទី៥

A verb of two or more syllables whose last syllable contains only one vowel . End s in the consonant is doubled if the stress falls on the last syllable.

កាលណាកិរិយាស័ព្ទណាមួយមានពីរព្យាង្គឬលើសពីពីរព្យាង្គ ហើយព្យាង្គចុងក្រោយរបស់វាមានស្រះមួយបញ្ចប់ដោយព្យញ្ជនៈតែមួយគត់នៅខាងចុង យើងត្រូវសរសេរព្យញ្ជនៈនោះអោយបានពីរសិនមុនបន្ថែម**ing**ប្រសិនបើសញ្ញាសង្កត់សំលេងរបស់វាសង្កត់ទៅលើព្យាង្គចុងក្រោយនោះ។

Example

| Begin | /bigin/ | Beginning | ចាប់ផ្ដើម |
|---|---|---|---|
| Fulfill | /fulfill/ | Fulfilling | បំពេញ |
| Regret | /regret/ | Regretting | សោកស្ដាយ |
| Prefer | /prifə:/ | Preferring | ចូលចិត្តជាង |
| Forbid | /fəbid/ | Forbidding | ហាមឃាត់ |
| Admit | /ədmit/ | Admitting | សារភាព |
| Forget | /fəget/ | Forgetting | ភ្លេច បំភ្លេច |

**Note**

| Budget | Budgeting | ធ្វើគម្រោងថវិកា |
|---|---|---|

| | | |
|---|---|---|
| **Enter** | Entering | ចូល |
| **Visit** | Visiting | ទៅលេង មកសួរសុខទុក្ខ |
| **Offer** | Offering | ផ្តល់ជូន |

B/. Question ( )

Formula ( )

Am +subject +verb +ing……?
Is+subject +verb + ing……?
Are+subject +verb +ing……?

Example

Example1 Am I drinking beer?
តើខ្ញុំកំពុងផឹកស្រាបៀរមែនទេ?

Example2 Is she swimming in the pool?
តើគាត់កំពុងតែហែលទឹកនៅក្នុងអាងហែលទឹក?

Example3 Is your mother cooking?
តើម្តាយអ្នកកំពុងតែចំអិនអាហារមែនទេ?

Example4 Is your dog sleeping?
តើឆ្កែកំពុងតែដេករឺ?

Example5 Are we plating music?
តើពួកយើងកំពុងតែប្រគុំតន្ត្រីមែនទេ?

Example6 Are they dancing in the room?
តើពួកគេកំពុងរាំក្នុងបន្ទប់រឺ?

Example7 Are your brothers watching T.V?
តើបងប្អូនប្រុសរបស់អ្នកកំពុងតែមើលទូរទស្សន៍ឬ?

C/. Negative

Formula

Subject + am/is/are + not + verb + ing

Example

Example1 I am not watching T.V.
ខ្ញុំមិនមែនកំពុងមើលទូរទស្សន៍ទេ។

Example2 He is not speaking English.
គាត់មិនមែនកំពុងនិយាយអង់គ្លេសទេ។

Example3 She is not phoning to her friend.
នាងមិនមែនកំពុងនិយាយទូរស័ព្ទទៅមិត្តរបស់នាងទេ។

Example4 We are not having breakfast.
ពួកយើងមិនមែនកំពុងហូបអាហារពេលព្រឹកទេ។

Example5 It is not raining now.
ឥឡូវនេះមេឃមិនកំពុងភ្លៀងទេ។

Example6 They are not drinking wine.

ពួកគេមិនកំពុងផឹកស្រាទេ។

Special use of present Continuous Tense

(ការប្រើជាលក្ខណៈពិសេសរបស់បច្ចុប្បន្នកាលកំពុងបន្ត)

- The present Continuous Tense can be used to express an action which will happen in the future.
- បច្ចុប្បន្នកាលកំពុងបន្តអាចប្រើសម្រាប់បញ្ជាក់ពីសកម្មភាពមួយដែលវានឹងកើតឡើងក្នុងពេលខាងមុខ។

Example1 I am going London next year.
ឆ្នាំក្រោយខ្ញុំនឹងទៅទីក្រុងឡុងដុនហើយ។

Example2 He is marrying me next month.
គាត់នឹងរៀបការជាមួយខ្ញុំនៅខែក្រោយនេះហើយ។

Example3 We are travelling to Angkor Wat this weekend.
ពួកយើងនឹងធ្វើដំណើរទៅលេងអង្គរវត្តនៅថ្ងៃចុងសប្តាហ៍នេះហើយ។

The present Continuous Passive Voice

Formula

Subject + am/is /are + being + Past Participle (កិរិយាស័ព្ទជួរទី៣)

Example

Example1 I am being cheated.
ខ្ញុំកំពុងតែត្រូវបានគេបោកប្រាស់ហើយ។

Example2 We are being criticized.
ពួកយើងកំពុងតែត្រូវបានគេរិះគន់ហើយ។

Example3 He is being trained.
គាត់កំពុងតែត្រូវបានគេបង្ហាត់បង្រៀន។

Example4 My house is being decorated.
ផ្ទះខ្ញុំកំពុងត្រូវបានគេជួសជុល។

Example5 The mouse is being caught by a cat.
កណ្តុរត្រូវបានសត្វឆ្មាកំពុងតែដេញចាប់។

ទុកចោលវាចាស់ប្រើណាស់វាថ្មី

# Unit3 Present perfect បច្ចុប្បន្នកាលធម្មតា

- The use(ការប្រើ)
- Definition(និយមន័យ)

We use Present Perfect to describe an action, which finished at some time in the past but we don't know exactly when (the time is not important)

យើងប្រើបច្ចុប្បន្នកាលសំបូរ សម្រាប់ពិពណ៌នា អំពីសកម្មភាពមួយដែលបានបញ្ចប់នៅពេលណាមួយក្នុងអតីតកាល ប៉ុន្តែយើងមិនដឹងពេលច្បាស់លាស់ទេ។(ពេលវេលាមិនសំខាន់ទេ)។

- Formula(រូបមន្ត)
- Positive(ប្រយោគស្រប)

Subject + have/has + Past participle (កិរិយាស័ព្ទជួរទីបី)

1/. យើងប្រើរូបមន្ត Subject + have + Past participle កាលណាSubject ជាបុរសទី១ (I We) បុរសទី២ (You) និងបុរសទីពពហុវចនៈ(They)។

Example1 I have bought a lot of books. I've bought a lot of books.
ខ្ញុំបានទិញសៀវភៅជាច្រើន។

Example2 We have seen your son along the road. We've seen your son along the road.
ពួកយើងបានឃើញកូនប្រុសរបស់អ្នកនៅតាមផ្លូវ។

Example3 you have eaten a lot of bananas. You've eaten a lot of bananas.
អ្នកឯងបានហូបផ្លែចេកអស់ជាច្រើន។

Example4 They have left here. They've left here.
ពួកគេបានចាកចេញពីទីនេះហើយ។

2/. យើងប្រើSubject + has + Past participleកាលណាSubjectជាបុរសទី៣ពហុវចនៈ(He she it)។

Example1 He has sold his car.
He's sold his car.
គាត់បានលក់រថយន្តរបស់គាត់ហើយ។

Example2 she has given a gold ring.
She's given a gold ring
នាងបានអោយចិញ្ចៀនមាសខ្ញុំមួយវង់

Example3 It has run a way.
It's run a way.
វាបានរត់បាត់ទៅហើយ។

❖ **Question**
Have /has + subject + past Participile…?

Example1 Have you washed your clothes?
តើអ្នកបោកខោអាវរបស់អ្នកហើយរឺ?

Example2 Have we received letter from dara?
តើយើងបានទទួលសំបុត្រពីដារ៉ាហើយរឺ?

Example3 Has your father sold his car?
តើឪពុករបស់អ្នកបានលក់រថយន្តរបស់គាត់រឺ?

Example4 Has your sister bought a new house?
តើបងស្រីរបស់អ្នកបានទិញផ្ទះថ្មីមួយរឺ?

Example5 Has your dog bitten the cat?
តើឆ្កែរបស់អ្នកបានខាំឆ្មារឺ?

Example6 Have your friends come here?
តើមិត្តភក្តិរបស់អ្នកបានមកទីនេះរឺ?

Example7 Have I given you money?
តើខ្ញុំបានអោយប្រាក់អ្នកហើយរឺ?

Example8 Have they cheated your mother?
តើពួកគាត់បានបោកប្រាស់ម្តាយរបស់អ្នករឺ?

Example9 Has it run a way?
តើវារត់ទៅបាត់ហើយរឺ?

❖ Negative
Subject + have/has + not + Past Participle

- Have not =Haven't
- Has not=Hasn't

Example1 I have not bought a new book.
I haven't bought a new book.
ខ្ញុំមិនបានទិញសៀវភៅថ្មីទេ។

Example2 We have not visited AngkorWat.
We haven't visited AngkorWat.
ពួកយើងមិនបានទៅលេងអង្គរវត្តទេ។

Example3 She has not come to school.
She hasn't come to school.
នាងមិនបានមកសាលារៀនទេ។

Exampple4 He has not met me.
He hasn't met me.
គាត់មិនបានជួបខ្ញុំទេ។

Example5 We have not eaten Chinese noodles.
We haven't eaten Chinese noodles.
ពួកយើងមិនបានហូបគុយទាវទេ។

Example6 I have not loved you. I have not loved you.
ខ្ញុំមិនបានស្រលាញ់អ្នកទេ។

Example7 They have not studied English. They haven't studied English.
ពួកគាត់មិនបានរៀនភាសាអង់គ្លេសទេ។

Note (កំណត់ចំណាំ)

The time expressions that are commonly used with this tense.

ពាក្យដែលបញ្ជាក់ពីពេលវេលានៅក្នុងកាលនេះមាន:

Already, just, yet, ever, never for, since, recently, always and now.

Example1 The government has already pledged it sift to root out corruption.
រដ្ឋាភិបាលបានសន្យាថាបំបាត់ចោលនូវអំពើពុករលួយអោយអស់ទាំងស្រុង

Example2 I have just separated from her for a year.
ខ្ញុំទើបតែបានលែងលះគ្នាជាមួយនាងបានរយះពេលមួយឆ្នាំ។

Example3 Have you asked permission from him yet?
តើអ្នកឯងបានសុំការអនុញ្ញាតិពីគាត់ហើយរឺនៅ?

Example4 He has taken control for ever five years.
គាត់បានត្រួតត្រាអស់រយះពេលជាប្រាំឆ្នាំ។

Example5 He has won the election since 1998.
គាត់បានឈ្នះការបោះឆ្នោតតាំងពីឆ្នាំ១៩៩៨។

**The passive voice**
**Formula:**
Subject + have/has + been + Past Participle

Active: Someone has poisoned her dog. គេបំពុលឆ្កែរបស់នាង។

Passive: Her dog has been poisoned by someone.
ឆ្កែរបស់នាងត្រូវបានគេបំពុល។

Example1 The details of murder have been revealed by the new sapper.
ពត៌មានលំអិតអំពីអំពើឃាតកម្មត្រូវបានលាតត្រដាងអោយដឹងដោយសារពត៌មាន។

Example2 The Prime minister has been forced to resign for age.
នាយករដ្ឋមន្ត្រីត្រូវបានគេបង្ខំអោយលាលែងពីតំណែងអស់មួយជីវិត។

Example3 They have been charged with the attempt murder of the president.
ពួកគាត់ត្រូវបានគេចោទប្រកាន់អំពីការប៉ុនប៉ងធ្វើឃាតប្រធានាធិបតី។

Example4 This pagoda has been destroyed by Pol Pot.
វត្តនេះត្រូវបានប៉ុលពតបំផ្លាញចោល។

Example5 The bank has been stolen by the robbers.
ធនាគារត្រូវបានពួកចោរប្លន់ចូលមកប្លន់។

Example6 The car has been burnt by the gangsters.
រថយន្តនេះត្រូវបានពួកក្រុមយូកូមដុតចោល។

# Unit4 Present Perfect Continuous

# បច្ចុប្បន្នកាលសំបូរកំពុងបន្ត

The use (ការប្រើប្រាស់)

Definition(និយមន័យ)

The present Perfect Continues is used for an action, which began sometime in the past and it's still going on at the present in the moment.

បច្ចុប្បន្នកាលសំបូរកំពុងបន្តប្រើសម្រាប់សកម្មភាពមួយដែលបានចាប់ផ្តើមនៅពេលណាមួយក្នុងពេលអតីតកាលហើយវានៅតែបន្តរហូតដល់ពេលបច្ចុប្បន្ន។

Formula (រូបមន្ត)

Positive (ប្រយោគស្រប)

subject + have/has + been + verb + ing

Example1I have been watching T.V for three houses.

ខ្ញុំបានមើលទូរទស្សន៍អស់រយៈពេល៣ម៉ោងហើយ។

Example2She has been singing since nine o'clock.

នាងបានច្រៀងតាំងពីម៉ោង៩កន្លះ។

Example3He has been sleeping for one hour.

គាត់បានគេងអស់រយៈពេលមួយម៉ោងហើយ។

Example4We have been playing football for two hours.

ពួកយើងបានលេងបាល់ទាត់អស់រយៈពេល២ម៉ោងហើយ។

How to add ing (របៀបបន្ថែមing)

1/. First Cass (ករណីទីមួយ)

We a verb ends in a single e , this e is dropped down before adding ing.

នៅពេលដែលកិរិយាស័ព្ទមួយបញ្ចប់ដោយអក្សរ e តែមួយនៅខាងចុង e យើងត្រូវលុបអក្សរនោះជាមុនសិនទើបបន្ថែម ing ។

| Drive | driving |
|---|---|
| **Write** | writing |
| **Smoke** | smoking |
| **Dance** | dancing |
| **Come** | coming |
| **Leave** | leaving |
| **Type** | typing |

Example1 I have been driving for six hours.

ខ្ញុំបានបើកបរអស់រយៈពេល៦ម៉ោងមកហើយ។

Example2 She has been dance for ten minutes.

នាងបានរាំអស់រយះពេល១០នាទីមកហើយ។

2/. Second Case: (ករណីទី២)

When a verb ends in ie , the ie are changed to y before adding ing

នៅពេលដែលកិរិយាស័ព្ទមួយបញ្ចប់ដោយ ie នៅខាងចុង យើងត្រូវប្តូរ ie នៅខាងចុង ie អោយទៅជាY សិនមុននឹងបន្ថែម ing។

lie => lying
tie => tying

Example He has been lying on the beach for one hour.

3/. Third Cass: (ករណីទី៣)

When a verb of one syllable has vowel, ends in a single consonant, this consonant is doubled before adding ing.

នៅពេលកិរិយាស័ព្ទមួយដែលមានតែមួយព្យាង្គមានស្រះតែមួយហើយបញ្ចប់ដោយព្យញ្ជនៈតែមួយគត់នៅខាងចុងយើងត្រូវសរសេរព្យញ្ជនៈខាងចុងនោះអោយបានពីរសិនទើបយើងបន្ថែម ing ។

| Cut | Cutting |
|---|---|
| Swim | swimming |
| Run | Running |
| Clap | Clapping |
| Dig | Digging |
| drop | Dropping |
| Chop | Chopping |
| Step | Stepping |
| Put | Putting |
| Hit | Hitting |
| Rub | Rubbing |
| Rob | Robbing |
| Beg | Begging |
| Stop | Stopping |

Example1 We have been swimming for two hours.
ពួកយើងបានហែលទឹកលេង២ម៉ោងហើយ។

Example2 He has been running since the morning.
គាត់បានរត់តាំងពីព្រលឹមមកម្លេះ។

4/. Fourth Cass (ករណីទី៤)

When a verb of two or more syllables whose last syllable contains only one vowel ends in single consonant, the consonant is doubled if the stress falls on the last syllable.

នៅពេលដែលកិរិយាស័ព្ទមួយមានពីរព្យាង្គ រឺលើសពីពីរព្យាង្គ ហើយដែលនៅចុងក្រោយរបស់វាមានស្រះតែមួយ ហើយបញ្ចប់ដោយព្យញ្ជនៈតែមួយយើងត្រូវសរសេរព្យញ្ជនៈខាងចុងនោះអោយបានពីរមុននឹងបន្ថែម ing (ប្រសិនបើសញ្ញាសង្កត់ព្យាង្គចុងក្រោយនោះ)។

| Regret | regretting |
|---|---|
| Prefer | preferring |
| Begin | beginning |
| Fulfill | fulfilling |
| Forbid | forbidding |
| Admit | admitting |
| Forget | forgetting |

But u

| Budget | budgeting |
|---|---|
| Enter | entering |
| Offer | offering |
| Visit | visiting |

Question (ប្រយោគសំណួរ)

Have/has + subject + been + verb + ing

Example1 How long have you been watching T.V?
តើអ្នកឯងបានមើលទូរទស្សន៍អស់រយៈពេលប៉ុន្មានមកហើយ?

Example2 How long has she been swimming?
តើអ្នកបានហែលទឹកអស់រយៈពេលប៉ុន្មានហើយ?

Example3 How long is He been teacher English?
តើគាត់បានបង្រៀនភាសាអង់គ្លេសអស់រយៈពេលប៉ុន្មានហើយ?

Example4 How long have they been playing football?
តើពួកគាត់បានលេងបាល់ទាត់អស់រយៈពេលប៉ុន្មានហើយ?

Example5 How long have we been reading?
តើពួកយើងបានអានសៀវភៅអស់រយៈពេលប៉ុន្មានមកហើយ?

Negative

Subject + have/has + not + been + verb + ing

Example1 I have not been watching T.V for one hour.
I haven't been watching T.V for one hour.
ខ្ញុំមិនបានមើលទូរទស្សន៍អស់រយៈពេល១ម៉ោងទេ។

Example2 My friend has not been reading for two hours.
My friend hasn't been reading for two hours.
មិត្តភក្តិរបស់ខ្ញុំមិនបានអានសៀវភៅអស់រយៈពេល២ម៉ោងទេ។

Example3 She has not been swimming since the afternoon.
She hasn't been swimming since the afternoon.
នាងមិនបានហែលទឹកតាំងពីថ្ងៃត្រង់នោះទេ។

The Passive Voice

Subject + have/has + been + being + past participle

Example1 We have been being played a trick on for two weeks.

គេបានលេងល្បិចមកលើពួកយើងអស់រយៈពេលពីរសប្ដាហ៍ហើយ។

Example2 Two staff workers have been being dismissed from work for three month.
បុគ្គលិកពីរនាក់ត្រូវបានគេបណ្ដេញចេញពីការងារអស់រយៈពេលបីខែហើយ។

Example3 The building has been being abandoned for six years.
អាគារនេះត្រូវបានគេបោះបង់ចោលអស់រយៈពេល៦ឆ្នាំហើយ។

(This tense is not commonly used in passive voice)

# Unit5 Past simple (អតីតកាលធម្មតា)

- The use (ការប្រើប្រាស់)
- Definition (និយមន័យ)

We use Past simple to express an action that took place at a definite time in the past.

យើងប្រើអតីតកាលធម្មតាដើម្បីបញ្ជាក់ពីសកម្មភាពមួយដែលបានកើតឡើងក្នុងវេលាមួយច្បាស់លាស់នាពេលអតីតកាល។

Formulas (រូបមន្ត)

- Positive
Subject + infinitive + ed + (other information)
Subject + infinitive + d + (other information)

ប្រធាន +កិរិយាស័ព្ទដើម + ed/d + (សេចក្តីបន្ថែមផ្សេងៗទៀត)

| **Work** | **Work<u>ed</u>** | **ធ្វើការ** |
|---|---|---|
| **Walk** | Walk<u>ed</u> | ដើរ |
| **Express** | Express<u>ed</u> | សំដែងយោបល់ |
| **Wait** | Wait<u>ed</u> | រង់ចាំ |
| **Wash** | Wash<u>ed</u> | លាងសំអាត |
| **Watch** | Watch<u>ed</u> | មើល |
| **Clean** | Clean<u>ed</u> | ជូតសំអាត |
| **Talk** | Talk<u>ed</u> | និយាយពិភាក្សា |
| **Discuss** | Discuss<u>ed</u> | ពិភាក្សា |
| **Brush** | Brush<u>ed</u> | ដុសសំអាត |
| **Need** | Need<u>ed</u> | ត្រូវការ |
| **Want** | Want<u>ed</u> | ចង់បាន |
| **Finish** | Finish<u>ed</u> | បញ្ចប់ |

Example1 I watched T.V last night.

ខ្ញុំមើលទូរទស្សន៍កាលពីយប់មិញ។

Example2 He washed his car yesterday.
គាត់បានលាងរថយន្តរបស់គាត់កាលពីម្សិលមិញ។

Example3 She cleaned her house last week.
កាលពីសប្តាហ៍មុននាងបានសំអាតផ្ទះរបស់នាង។

Example4 We discussed about this problem last night.
ពួកយើងបានពិភាក្សាគ្នាអំពីបញ្ហានេះកាលពីយប់មិញ។

❖ How to add ed and d របៀបបន្ថែម ed និង d

1/. First Cass (ករណីទី១)

When verb end in a single e add only d

នៅពេលដែលកិរិយាស័ព្ទទាំងឡាយបញ្ចប់ដោយ អក្សរ e តែមួយគត់យើងបន្ថែមតែអក្សរ d ប៉ុណ្ណោះ។

| dance | Danced | រាំ |
|---|---|---|
| type | Typed | វាយអង្គុលីលេខ |
| smoke | Smoked | ជក់បារី |
| arrive | Arrived | មកដល់ ទៅដល់ |
| move | Moved | ផ្លាស់ទី |
| love | Loved | ស្រលាញ់ |
| snore | Snored | ស្រមុក |
| reserve | Reserved | កក់ទុកជាមុន |
| receive | Received | ទទួល |

Example1 I danced with Bopha last Sunday.
កាលពីថ្ងៃអាទិត្យមុនខ្ញុំបានរាំជាមួយនាងបុប្ផា។

Example2 My mother arrived home yesterday.
ម្តាយរបស់ខ្ញុំបានមកដល់ផ្ទះកាលពីម្សិលមិញ។

Example3 We reserved restaurant last two weeks.
ពួកយើងបានកក់ភោជនីដ្ឋានកាលពីកន្លះខែមុន។

Example4 I smoked a lot last night.
យប់មិញខ្ញុំបានជក់បារីយ៉ាងច្រើន។

Example5 We moved here last year.
ពួកយើងខ្ញុំបានផ្លាស់ប្តូរទីលំនៅមកទីនេះកាលពីឆ្នាំមុន។

2/. Second Cass (ករណីទី២)

When verb of one syllable have one vowel, end in a single consonant, The consonant is doubled before adding ed.

នៅពេលកិរិយាស័ព្ទទាំងឡាយណាដែលមានមួយព្យាង្គ មានស្រៈតែមួយហើយបញ្ចប់ដោយព្យញ្ជនៈខាងចុងនោះអោយបានពីរសិនទើបយើងបន្ថែម ed ។

| Stop | Stopped | ឈប់ បញ្ឈប់ |
|---|---|---|
| **Stab** | Stabbed | ចាក់ |
| **Beg** | Begged | សុំ |
| **Spell** | Spelled | ប្រកបអក្សរ |
| **Shop** | Shopped | ទិញទំនិញ |
| **Rob** | Robbed | ប្លន់ |
| **Rub** | Rubbed | ដុស ត្រដុស លប់ |
| **Step** | Stepped | បោះជំហាន |
| **Tip** | Tipped | ផ្អៀង |

Example1 I stopped study French ten years ago.
ខ្ញុំបានឈប់រៀនភាសាបារាំងកាលពី១០ឆ្នាំមុន។

Example2 The robbers robbed the bank last week.
ពួកចោរប្លន់បានប្លន់ធនាគារកាលពីសប្តាហ៍មុន។

3/. Third Cass (ករណីទី៣)

We verbs of two or more syllables whose last syllable contain only one vowel, ends in a single consonant, the consonant is doubled if the stress falls on the last syllable.

នៅពេលកិរិយាស័ព្ទទាំងឡាយណាមានពីរព្យាង្គរឺលើសពីពីរព្យាង្គហើយព្យាង្គខាងក្រោយរបស់វាមានស្រៈមួយ ហើយបញ្ចប់ដោយព្យញ្ជនៈតែមួយគត់នៅខាងចុងយើងត្រូវសរសេរព្យញ្ជនៈខាងចុងនោះអោយបានពីរសិនទើបបន្ថែម ed (យើងធ្វើដូចនេះបានលុះត្រាតែសញ្ញាសង្កត់សម្លេងនៅព្យាង្គខាងក្រោយ)។

| **Admit** | **Admitted** | សារភាព |
|---|---|---|
| **Commit** | Committed | ប្រព្រឹត្តអំពើអាក្រក់ |
| **prefer** | Preferred | ចូលចិត្ត |

| | | |
|---|---|---|
| **regret** | Regretted | សោកស្ដាយ |

Example1 He admitted about his fault last week.
គាត់បានសារភាពអំពីកំហុសរបស់ទាត់កាលពីសប្ដាហ៍មុន។

Example2 We committed a lot of bad thing ten year ago.
កាលពី១០ឆ្នាំមុនពួកយើងបានប្រព្រឹត្តអំពើអាក្រក់ជាច្រើន។

Example3 I preferred French to English five years ago.
កាលពីប្រាំឆ្នាំមុនខ្ញុំចូលចិត្តភាសាបារាំងជាងភាសាអង់គ្លេស។

4/. Fourth Cass (ករណីទី៤)

When verbs end in **y** preceded a consonant, the **y** is change to **I** before adding **ed**.

នៅពេលកិរិយាស័ព្ទទាំងឡាយណាបញ្ចប់ដោយអក្សរ **Y** នៅខាងចុងហើយនាំមុខដោយព្យញ្ជនៈតែមួយ យើងត្រូវប្ដូរអក្សរ **y** អោយទៅជាអក្សរ **I** សិនទើបបន្ថែមអក្សរ **ed** ជាក្រោយ។

| **marry** | **Married** | រៀបការ |
|---|---|---|
| **carry** | Carried | យួ, សែង , ដឹក |
| **cry** | Cried | យំ |
| **try** | Tried | ព្យាយាម, សាកល្បង |
| **fry** | Fried | ចៀន ឆា |
| **fly** | Flied | ហោះ,ហើរ |

Example1 My mother fried a lot of fish last night.
កាលពីយប់មិញម្ដាយរបស់ខ្ញុំបានចៀនត្រីជាច្រើន។

Example2 My sister cried last month.
កាលពីយប់មុនប្អូនស្រីខ្ញុំយំ។

Example3 The police tried to arrest the robbers yesterday morning.
កាលពីព្រឹកម្សិលមិញប៉ូលីសបានព្យាយាមដេញតាមចាប់ពួកចោរប្លន់។

5/. Fifth Cass (ករណីទី៥)

When verbs end in **y** preceded a vowel, y is not change when we add ed.

នៅពេលដែលកិរិយាស័ព្ទទាំងឡាយបញ្ចប់ដោយអក្សរ **y** ហើយនាំមុខដោយស្រៈ អក្សរ **y** នោះទុកដដែល រួចហើយបន្ថែម **ed** .

| **play** | **Played** | លេង |
|---|---|---|
| **stay** | Stayed | ស្នាក់នៅ |

| | | |
|---|---|---|
| **pray** | Prayed | បួងសួង |
| **obey** | Obeyed | ស្តាប់បង្គាប់ |
| **destroy** | Destroyed | បំផ្លាញ |

Example1 I played tennis with Dara yesterday?

ខ្ញុំបានលេងតេនីសជាមួយដារ៉ាកាលពីម្សិលមិញ។

Example2 The people in the village prayed for rain last month?

កាលពីខែមុនប្រជាជននៅក្នុងភូមិបានបួងសួងសុំទឹកភ្លៀង។

Example3 She stayed with my family two years ago.

កាលពីពីរឆ្នាំមុននាងបានស្នាក់នៅជាមួយក្រុមគ្រួសាររបស់ខ្ញុំ។

❖ Question

Did + subject + infinitive

Example1 Did your sister cry last night?

តើការពីយប់មិញប្អូនស្រីឯងយំមែនទេ?

Example2 Did we play cards last week?

តើកាលពីសប្តាហ៍មុនយើងលេងបៀមែនទេ?

Example3 Did you dance with Bopha yesterday?

តើកាលពីម្សិលមិញអ្នកបានរាំជាមួយបុប្ផាមែនទេ?

Example4 Did you move your house last year?

តើអ្នកឯងបានផ្លាស់ប្តូរទីលំនៅកាលពីឆ្នាំមុនមែនទេ?

Example5 Did your mother arrive home last night?

តើម្តាយអ្នកឯងមកដល់ផ្ទះកាលពីយប់មិញមែនទេ?

❖ Negative

Subject + did + not + infinitive

did not => didn't

Example1 She did not watch T.V last night.
She didn't watch T.V last night.

នាងមិនបានមើលទូរទស្សន៍ទេកាលពីយប់មិញ។

Example2 I did not come to school last week.
I didn't come to school last week.

ខ្ញុំមិនបានមករៀនទេកាលពីសប្តាហ៍មុន។

Example3 We did not sleep last Monday.
We didn't sleep last Monday.

ពួកយើងមិនបានដេកទេកាលពីថ្ងៃច័ន្ទសប្តាហ៍មុន។

- **The Past Time Expressions**

Yesterday, morning, last night, last week, last month, last year, later, finally, suddenly, recently, before, ago, a year ago …etc.

- **The Passive Voice**

Subject + was/were + past participle

Example1 Ten people were killed yesterday.
មនុស្ស១០នាក់ត្រូវបានគេសម្លាប់កាលពីម្សិលមិញ។

Example2 There house were burnt last year.
ឆ្នាំមុនផ្ទះពាខ្នងត្រូវបានគេដុតចោល។

Example3 He was hit on his head last night.
គាត់ត្រូវបានគេវាយចំក្បាលកាលពីយប់មិញ។

មើលបានច្រើនប្រសើរជាងមើលបានតិចមើលនៅភ្លេចប្រសើរជាងមិនដែលមើលសោះ!

# Unit6 Past Continuous Tense (អតីតកាលកំពុងបន្ត)

- The use (របៀបប្រើប្រាស់)
- Definition (និយមន័យ)

We use Past Continuous Tense to describe the past action which is interrupted by another Past action. This second action is described by the Past Simple.

យើងប្រើអតីតកាលកំពុងបន្តដើម្បីពិពណ៌នាអំពីសកម្មភាពអតីតកាលមួយដែលបង្អាក់ដោយសកម្មភាពអតីតកាលមួយផ្សេងទៀត។(សកម្មភាពទី២ដែលមកបង្អាក់នោះតត្រូវសរសេរជាអតីតកាលធម្មតា)។

- Formula (រូបមន្ត)

Subject + was/were + verb + ing

Example1 My mother called me when I was drinking coffee.
ម្ដាយរបស់ខ្ញុំបានហៅខ្ញុំនៅពេលដែលខ្ញុំកំពុងផឹកកាហ្វេ។

Example2 She knocked the door when we were reading.
នាងបានគោះទ្វានៅពេលដែលពួកយើងកំពុងអានសៀវភៅ។

Example3 I was watching television when the phone rang.
ពេលដែលខ្ញុំកំពុងមើលទូរទស្សន៍ទូរស័ព្ទក៏បានរោទ៍សំលេងឡើង។

Example4 I was working when she came in.
នាងបានចូលមកនៅពេលដែលខ្ញុំកំពុងធ្វើការ។

Example5 He left here when the children were playing football.
គាត់បានចាកចេញពីទីនេះនៅពេលពួកក្មេងៗកំពុងលេងបាល់ទាត់។

Example6 This time last year, I was learning in Thailand.
នៅពេលនេះកាលពីឆ្នាំមុនខ្ញុំកំពុងរៀនអង់គ្លេស។

Example7 Yesterday morning, she was cooking.
កាលពីព្រឹកម្សិលមិញ នាងកំពុងចំអិនអាហារ។

Example8 This time last month, we were staying in Thailand.
នៅក្នុងពេលនេះកាលពីខែមុនពួកយើងកំពុងតែនៅប្រទេសថៃ។

Example9 This time last night, he was drinking beer.
នៅក្នុងខណៈនេះកាលពីយប់មិញគាត់កំពុងផឹកស្រាបៀរ។

Example10 At ten o'clock last night, we were watching T.V.
កាលពីម៉ោង១០យប់មិញពួកយើងកំពុងមើលទូរទស្សន៍។

- Question

Was/were + subject + verb + ing

Example1 Were you learning English this time last year?
តើកាលពីឆ្នាំមុននៅខណៈពេលនេះអ្នកកំពុងរៀនភាសាអង់គ្លេសរឺ?

Example2 Was she swimming this time yesterday?
តើពីម្សិលមិញនៅខណៈនេះនាងកំពុងហែលទឹករឺ?

Example3 Were they working this time ten years ago?
តើកាលពី១០ឆ្នាំមុននៅខណៈនេះពួកគេកំពុងតែធ្វើការរឺ?

- Negative
  Subject + was/were + not + verb + ing
  Was not => wasn't
  Were not => weren't

Examppple1 This time yesterday, I was not working.
This time yesterday, I wasn't working.
កាលពីម្សិលមិញក្នុងខណៈនេះខ្ញុំមិនកំពុងធ្វើការទេ។

Example2 This time last year, we were not drinking beer.
This time last year, we weren't drinking beer.
កាលពីឆ្នាំមុនខណៈនេះពួកយើងមិនមែនកំពុងផឹកស្រាបៀរទេ។

Not (កំណត់ចំណាំ)

The Past Continuous Tense can also be used in both part of a sentence when two actions are in progress simultaneously.

យើងអាចប្រើអតីតកាលកំពុងបន្តបានសម្រាប់សកម្មភាពទាំងពីរប្រសិនបើវាកើតឡើងព្រមគ្នា។

Example1 She was playing piano when I was phoning.
នៅពេលដែលខ្ញុំកំពុងតែនិយាយទូរស័ព្ទនាងក៏កំពុងតែលេងព្យាណូ។

Example2 when I was driving she was sleeping.
នៅពេលខ្ញុំកំពុងបើកបររថយន្តនាងក៏កំពុងដេកដែរ។

Example3 When I was reading my son was crying.
នៅពេលដែលខ្ញុំកំពុងអានសៀវភៅកូនប្រុសរបស់ខ្ញុំក៏កំពុងតែយំដែរ។

- The Passive Voice
  Subject + was/were + being + Past Participle

Example1 At the same time last night, he was being attacked on his head.
នៅពេលថ្មើរនេះកាលពីយប់មិញគាត់បានគេវាយក្បាលរបស់គាត់។

Example2 At the sometime last year, I was being cheated $100.
នៅពេលថ្មើរនេះកាលពីឆ្នាំមុនខ្ញុំត្រូវបានគេបោកអស់លុយ១០០ដុល្លា។

Example3 This time ten years ago, she was being hit by a car.
នៅពេលថ្មើរនេះកាលពី១០ឆ្នាំមុននាងត្រូវបានរថយន្តបុក។

សំណួរត្រិះរិះ!

សេះមាន១០ទ្រុងមាន៨យើងចង់ដាក់សេះ១០ក្នុងទ្រុង៨ឲ្យអស់ដោយទ្រុង១ដាក់បានសេះ១តើត្រូវធ្វើដូចម្តេច?

# Unit7 Past Perfect (អតីតកាលធម្មតា)

The use (ការប្រើ)

❖ Definition (និយមន័យ)

We use Past Prefect when we want to talk about two actions, which happened in the past and one of these finished earlier than the other.

❖ The earlier action is in the past perfect, the later action is in the past simple.

យើងប្រើ(អតីតកាលសំបូរ)នៅពេលដែលយើងចង់ពិពណ៌នាអំពីសកម្មភាពពីរដែលបានកើតឡើងក្នុងពេលអតីតកាល ហើយក្នុងសកម្មភាពទាំងពីរនោះមានមួយចប់ទៅមុនសកម្មភាពមួយផ្សេងទៀត។

❖ (ចំណាំ សកម្មភាពដែលចប់មុនត្រូវសរសេរជា Past Perfect រីឯសកម្មភាពដែលចប់ក្រោយត្រូវសរសេរជា Past simple)។

Formula (រូបមន្ត)

Positive Subject + had + past participle

Example1 I had known the answer before she told me.
ខ្ញុំបានដឹងចម្លើយមុនបបពេលនាងបានប្រាប់ខ្ញុំ។

Example2 She had kissed me before I said good bye.
នាងបានថើបខ្ញុំមុនពេល ខ្ញុំលានាង។

Example3 He had left the house before I arrived.
គាត់បានចាកចេញពីផ្ទះមុនពេលខ្ញុំមកដល់។

Example4 After the postman had arrived I gave him a letter.
បន្ទាប់ពីអ្នកនាំសំបុត្រមកដល់ខ្ញុំបានអោយសំបុត្រទៅគាត់មួយច្បាប់។

Example5 When I arrived, he had died.
នៅពេលដែលខ្ញុំមកដល់គាត់បានស្លាប់រួចទៅហើយ។

Question Had + subject + past participle

Example1 Had you cooked lunch before your mother called you?
តើអ្នកបានចំអិនអាហារថ្ងៃត្រង់មុនពេលម្តាយរបស់អ្នកទូរស័ព្ទមករឺ?

Example2 Had your friend arrived before you came?
តើមិត្តភក្តិរបស់អ្នកបានមកដល់មុនពេលអ្នកមកដល់រឺ?

Example3 Had she cried before you hit her?
តើនាងបានយំមុនពេលដែលអ្នកវាយនាងរឺ?

Example4 Had they known before you told them?
តើពួកគេបានដឹងមុនពេលដែលអ្នកបានប្រាប់ពួកគេរឺ?

Negative Subject + had + past participle

Example1 They had not known before I told them.
They hadn't known before I told them.
ពួកគេមិនបានដឹងមុនពេលខ្ញុំប្រាប់ពួកគេទេ។

Example2 She had not cried before I hit her.
She hadn't cried before I hit her.
មុនពេលខ្ញុំវាយនាងនាងមិនបានយំទេ។

Example3 I had not taught English before I lived here.
I hadn't taught English before I lived here.
ខ្ញុំមិនបានរៀនអង់គ្លេសទេមុនពេលដែលខ្ញុំបានមករស់នៅទីនេះ។

- Time expressions that are commonly used with his tense.
  When, after, before, as soon as, then, until....etc.

Example1 When I had turned the camera the birds flew away.
នៅពេលដេលខ្ញុំបែរម៉ាស៊ីនថតទៅសត្វស្លាបបានហើររអស់រលើង។

Example2 He had learn English before he want to UK.
គាត់បានរៀនអង់គ្លេស មុនពេលគាត់ទៅអង់គ្លេស។

**The Passive Voice**

Subject + had + been + past participle

Example They had been detained without trial by the court.
ពួកគេត្រូវបានចាប់ដាក់គុកដោយមកបានកាត់ក្ដីពីតុលាការ។

ទុកចោលវាចាស់ប្រើណាស់វា

# Unit8 Past Perfect Continuous (អតីតកាលសំបូរកំពុងបន្ត)

- The use (ការប្រើ)
- Definition (និយមន័យ)

  The past perfect Continues is used to show two past actions- one continued until the second began.
  គេប្រើអតីតកាលសំបូរកំពុងបន្ត ដើម្បីពិពណ៌នាអំពីសកម្មភាពអតីតកាលពីរដែលវាកើតឡើងបន្តបន្ទាប់គ្នា។
- The earlier action is in the past perfect continuous, the later action is in the past simple.
  សកម្មភាពដែលកើតមុនគេត្រូវសរសេរជា past perfect continuous រីឯ សកម្មភាពទីពីរត្រូវសរសេរជា past simple។
- Formula (រូបមន្ត)
- Positive (ប្រយោគស្រប)

  Subject + had + been + verb + ing

Example1 The patient had been waiting in the emergency room for an hour before a doctor treated her.
អ្នកជំងឺបានរង់ចាំនៅក្នុងបន្ទប់សង្គ្រោះបន្ទាន់អស់រយៈពេលមួយម៉ោងមុនពេលគ្រូពេទ្យព្យាបាលគាត់។

Example2 I had been learning English for 6 years before I found a good job.
មុនពេលដែលខ្ញុំរកការងារល្អបានធ្វើខ្ញុំបានរៀនភាសាអង់គ្លេស៦ឆ្នាំ។

Example3 I had been saving money for two years before I bought a new car.
ខ្ញុំបានសន្សំប្រាក់អស់រយៈពេល២ឆ្នាំមុនពេលខ្ញុំទិញរថយន្តថ្មីមួយ។

- Question (ប្រយោគសំណួរ)

  Had + subject + been + verb + ing

Example1 Had you been saving money for one year before you bought a flat?
តើអ្នកបានសន្សំប្រាក់អស់រយៈពេល១ឆ្នាំមុននឹងអ្នកទិញផ្ទះល្វែងរឺ?

Example2 Had he been learning English for 2 years before a good job?
តើអ្នកបានរៀនភាសាអង់គ្លេសរយៈពេល២ឆ្នាំមុននឹងអ្នករកការងារល្អបានធ្វើរឺ?

- Negative

  Subject + had + not + been + verb + ing

Example1 I had not been learning English before I want to America.
ខ្ញុំមិនបានរៀនភាសាអង់គ្លេសមុនពេលដែលខ្ញុំទៅប្រទេសសហរដ្ឋអាមេរិច។

Example2 He had not been saving money before he bought a telephone.
គាត់មិនបានសន្សំប្រាក់ទុកទេមុនពេលដែលគាត់បានទិញទូរស័ព្ទ។

Example3 She had not been learning to drive before she bought a car.

នាងមិនបានរៀនបើកបរទេមុនពេលដែលនាងទិញរថយន្តនោះ។



# Unit9 Simple Future (អតីតកាលធម្មតា)

- The used (ការប្រើ)
- Definition (និយមន័យ)

The simple future is used for an action which will be true or will occur in the future.

អនាគតធម្មតាត្រូវបានគេប្រើសម្រាប់សកម្មភាពមួយដែលវានឹងពិតប្រាកដរឺក៏នឹងកើតមានឡើងនៅក្នុងពេលអនាគតកាល។

- Formula (រូបមន្ត)
- Positive

Subject + will + infinitive
Subject + shall + infinitive

Example1 He will buy a new car next year.
គាត់នឹងទិញរថយន្តថ្មីមួយនៅឆ្នាំក្រោយ។

Example2 She will visit Angkor Wat next week.
នាងនឹងទៅលេងអង្គរវត្តនៅសប្តាហ៍ក្រោយនេះ។

Example3 They will clean their house this Sunday.
ពួកគេនឹងសំអាតផ្ទះរបស់ពួកគេនៅថ្ងៃអាទិត្យនេះហើយ។

- Question

Will + subject + infinitive
Shall + subject + infinitive

Example1 Will you work to night?
តើយប់នេះអ្នកឯងនឹងធ្វើការទេ?

Example2 Will they come here tomorrow?
តើថ្ងៃស្អែកពួកគេនឹងមកទីនេះទេ?

- Negative

Subject + will + not + infinitive
Subject + shall + not + infinitive

Example1 She will not come here to night.
យប់នេះនាងមិនមកទីនេះទេ។

Example2 They will not work next week.
ពួកគេនឹងបានធ្វើការងារទេនៅសប្តាហ៍ក្រោយ។

- Note

In British English shall is still used with I and we in question or when we want to make suggestion or an offer.

Example1 What shall I wear to the party to night?
តើខ្ញុំគួរស្លៀកពាក់បែបណាដើម្បីទៅចូលរួមក្នុងពិធីជប់លៀងនាពេលរាត្រីនេះ?

Example2 Shall we meet at three o'clock this afternoon?

តើពួកគេមកជួបជុំគ្នានៅម៉ោងបីរសៀលនេះមែនទេ?

❖ Note
Will and Be going to

❖ Will

1/. Will: used for a future decision or intention made at the moment of speaking.

យើងប្រើ" Will" សម្រាប់ការសម្រេចចិត្តនាពេលអនាគតរឺគោលបំណងដែលកើតឡើងភ្លាមនៅពេលកំពុងនិយាយ។

Example I will complaint to the manager tomorrow.
ថ្ងៃស្អែកខ្ញុំនឹងទៅតវ៉ាជាមួយប្រធានចាត់ចែង។

2/. Will: Used to express an offer or willing.
Will ប្រើសម្រាប់បញ្ជាក់ពីការផ្តល់ជូនរឺឆន្ទះ។

Example I will give you a book tomorrow.
ស្អែកខ្ញុំនឹងអោយសៀវភៅអ្នកមួយក្បាល។

3/. Will: Used for prediction, determination, or promise.
Will ប្រើសម្រាប់ការស្មានទុកជាមុន សម្រាប់ការតាំងចិត្តឬការសន្យាទុកជាមុន។

Example There will be rain tomorrow.
ស្អែកមេឃនឹងភ្លៀង។

4/. Will: Used for asking and ordering somebody to do something in the future.
Will ប្រើសម្រាប់ស្នើសុំ នឹងបង្គាប់អោយនរណាម្នាក់ធ្វើអ្វីមួយនៅពេលខាងមុខ។

Example1 Will you be quiet!
សុំអ្នកស្ងាត់បន្តិចបានទេ!

Example2 Will you send me some money?
សុំលោកជួយផ្ញើប្រាក់អោយខ្ញុំខ្លះបានទេ?

5/. Will: Used to express a future fact "The action is sure to happen in the future."
Will ប្រើសម្រាប់បញ្ជាក់ពីអនាគតមួយដ៏ជាក់លាក់(វាមានន័យថាសកម្មភាពនោះវានឹងកើតឡើងពិតប្រាកដមែន)។

Example1 She will pass the exam next month.
នាងនឹងប្រឡងជាប់នៅខែក្រោយ។

Example2 She wins the beauty contest next week.
នាងនឹងឈ្នះនូវការប្រឡងសម្ផស្សនៅសប្តាហ៍ក្រោយនេះ។

❖ Be going to

1/. Going to: Used for future decision, intention or plan made before the moment of speaking.

យើងប្រើ going to សម្រាប់ការសម្រេចចិត្តនាពេលអនាគត ជាគោលបំណងឬជាគម្រោងការដ៏ច្បាស់លាស់ដែលបានគ្រោងទុកជាមុន។

Example1: I'm going to buy a new car next year.

ខ្ញុំនឹងទិញរថយន្តថ្មីមួយនៅឆ្នាំក្រោយ។

2/. Going to : Used to show that something is likely to happen very soon or in the future.

យើងប្រើ going to ដើម្បីចង្អាក់ថាអ្វីមួយ វាទំណាងជាកើតឡើងក្នុងពេលឆាប់ៗនេះរឺក្នុងពេលអនាគត។

Example The sky is very dark. It's going to rain now.

មេឃខ្មៅងងឹតហើយវានឹងភ្លៀងឥឡូវនេះហើយ។

- The Passive Voice
  Subject + will + be + past participle
  Subject + shall + be + past participle

Example The school will be officially opened by the prime minister next week.

សាលារៀននឹងត្រូវការបើកអោយប្រើប្រាស់ដោយនាយករដ្ឋមន្ត្រីនៅសប្តាហ៍ក្រោយនេះ។

# Unit10 Future Continuous (អនាគតកាលកំពុងបន្ត)

- The use (ការប្រើ)
- Definition (និយមន័យ)

We use the Future Continuous to describe a continuous action at a fixed time in the future.
យើងប្រើអនាគតកាលកំពុងបន្តដើម្បីពិពណ៌នាសកម្មភាពមួយដែលបន្តក្នុងពេលណាមួយដែលបានកំណត់ក្នុងអនាគតកាល។

- Formula (រូបមន្ត)
- Positive (ប្រយោគស្រប)

Subject + will + be + verb + ing

Example1 I will be working alone next week.
ខ្ញុំនឹងធ្វើការតែម្នាក់ឯងនៅសប្តាហ៍ក្រោយ។

Example2 this month next year, I will be living in U.S.A.
ឆ្នាំក្រោយខែនេះខ្ញុំនឹងរស់នៅប្រទេសសហរដ្ឋអាមេរិច។

- Question

Will + subject + be + verb +ing

Example1 Will you be working here tomorrow?
តើថ្ងៃស្អែកអ្នកនឹងធ្វើការនៅទីនេះរឺ?

Example2 Will she be phoning you tonight?
តើយប់នេះនាងនឹងទូរស័ព្ទមកអ្នកមែនទេ?

- Negative

Subject + will + not + be + verb + ing

Example1 My mother will not be cooking tonight.
ម្តាយខ្ញុំនឹងមិនដាំស្លទេនៅយប់នេះ។

Example2 Sok will not be waiting for you this evening.
សុខនឹងមិនចាំអ្នកទេនៅពេលល្ងាចនេះ។

## Unit11 Future perfect (អនាគតកាលសំបូរ)

- The use
- Definition

We use future perfect to describe a future action will finish before another or before certain time.
យើងប្រើអនាគតកាលសំបូរដើម្បីពិពណ៌នាសកម្មភាពអនាគតកាលមួយដែលវានឹងចប់ទៅមុនសកម្មភាពមួយផ្សេងទៀតរឺមុនពេលណាមួយច្បាស់លាស់។

Formula

- Question Will + subject + have + past participle

Example1 Will you have arrived here before 2 o'clock?
តើអ្នកនឹងមកដល់ទីនេះមុនម៉ោង២មែនទេ?

Example2 Will she have given your car back before 6 o'clock this evening?
តើនាងនឹងយករថយន្តមកអោយអ្នកវិញនៅមុនម៉ោង៦ល្ងាចនេះមែនទេ?

- Negative Subject + will + not + have + past participle

Example1 I will not have finished my work by 6 o'clock this evening.
ខ្ញុំនឹងមិនអាចចញ្ចប់ការងាររបស់ខ្ញុំនៅម៉ោង៦ល្ងាចនេះបានទេ។

Example2 She will not have cooked lunch before I arrive.
នាងនឹងមិនចំអិនអាហារថ្ងៃត្រង់មុនពេលខ្ញុំមកដល់ទេ។

- Positive Subject + will + have + past participle

Example1 I will have finished my work by 6 o'clock this evening.
ខ្ញុំនឹងបញ្ចប់ការងាររបស់ខ្ញុំនៅម៉ោង៦ល្ងាចនេះ។

Example2 She will have cooked lunch before I arrive.
នាងនឹងចំអិនអាហារថ្ងៃត្រង់មុនពេលខ្ញុំមកដល់។

- Passive Voice Subject + will + have + been + past participle

Example The electricity supply will have been cut off for a month by next Sunday.
ក្រោយការផ្គត់ផ្គង់ភ្លើងអគ្គិសនីនឹងត្រូវកាត់ផ្តាច់រយះពេលមួយខែ។

# Unit12 Future perfect continuous
# (អនាគតកាលសំបូរកំពុងបន្ត)

- The use
- Definition

We use Future perfect continuous to describe a continuous action which will finish by a fix time in the future.

យើងប្រើ Future perfect continuous ដើម្បីពិពណ៌នាពីសកម្មភាពមួយដែលកំពុងបន្តហើយវានឹងចប់នៅពេលណាមួយដែលបានកំណត់នៅក្នុងពេលអនាគត។

- Formula
- Positive

Subject + will + have + been + verb + ing

Example1 This building will have been finishing next month.
អាគារនេះនឹងធ្វើរួចរាល់នៅខែក្រោយ។

Example2 She will have been staying here for one year.
នាងនឹងស្នាក់នៅទីនេះរយះពេលមួយឆ្នាំ។

- Question

Will + subject + have + been + verb + ing

Example1 Will the bus have been coming this evening?
តើរថយន្តក្រុងនឹងមកទេល្ងាចនេះ?

Example2 Will this book have been publishing next year?
តើសៀវភៅនេះនឹងត្រូវបោះពុម្ពផ្សាយនៅឆ្នាំក្រោយរឺ?

- Negative

Subject + will + not + have + been + verb + ing

Example1 This house will not have been finishing next week.
ផ្ទះនេះមិនអាចហើយនៅសប្តាហ៍ក្រោយទេ។

Example2 The train will not have been arriving tonight.
រថភ្លើងមិនអាចមកដល់នៅយប់នេះទេ។